ខ្មែរប៉ុស្តិ៍ ស.រ.អា

KhmerPost USA

Printing The Cambodian World News

VOL. 05 ISSUE 80 April 08th - 21th, 2011

ស៊ុបិន : (267) 253-3947, សែម : (781) 244-0522

MASSACHUSETTS
- LOWELL
- LYNN
- REVERE
- BOSTON
PENNSYLVANIA
RHODE ISLAND
NEW JERSEY


មាតិការឿង — ទំព័រ



# ខ្សែជីវិតថ្មីរបស់អតីតបងធំ



**រដ្ឋរ៉ូដអៃឡែន្ត, ប្រូវីដិន** : នៅក្នុងរដ្ឋរ៉ូដអៃឡែន្ត មានយុវជនខ្មែរមួយចំនួនដែលកំពុងធ្លាក់ខ្លួនដើរទៅក្នុងផ្លូវងងឹតដូចជា : ការសេព និងការជួញដូរគ្រឿងញៀន ការបង្កើតជាក្រុមបងតូច បងធំជាដើម ។ល។ មួយចំនួននៃយុវជនទាំងនោះបានលះបង់នូវទង្វើនោះចោល ហើយមួយចំនួនទៀតត្រូវបានអាជ្ញាធរអន្តោប្រវេសន៍ចាប់បញ្ជូនខ្លួនអោយត្រឡប់ទៅកាន់ប្រទេសកម្ពុជាវិញ។ លោក ឈុន ចាន់តារា ដែលជាអតីតសមាជិកក្រុមបងតូច បងធំ បានស្ម័គ្រចិត្តផ្តល់បទសម្ភាសន៍ដល់អ្នកយកព័ត៌មានយើងអំពីខ្សែជីវិតដ៏ជូរជាត់ និងមូលហេតុដែលជំរុញឱ្យជីវិតរបស់លោកដើរទៅក្នុងផ្លូវងងឹតនោះ។

លោក ឈុន ចាន់តារា កើតនៅក្នុងទីក្រុងភ្នំពេញ សង្កាត់ទួលទំពូង ក្រោយមកប្រទេសកម្ពុជាបានធ្លាក់ទៅក្នុងកណ្តាប់ដៃរបបប្រល័យពូជសាសន៍ ប៉ុល ពត ហើយបានជម្លាស់ប្រជាពលរដ្ឋដែលរស់នៅក្នុងទីក្រុងភ្នំពេញ ទាំងអស់ទៅរស់នៅតាមជនបទក្នុងនោះ បូករួមទាំងក្រុមគ្រួសាររបស់លោក ចាន់ តារា ផងដែរ រហូតមកដល់ឆ្នាំ១៩៧៩ គ្រួសាររបស់លោកបានភៀសខ្លួនទេ កាន់ជំរំខៅអ៊ីដាង ប្រទេសថៃ ហើយបានមានឈ្មោះ មកកាន់សហរដ្ឋអាមេរិកក្នុងឆ្នាំ១៩៨៤។ នៅក្នុងទឹកដី ដែលឡាស់ រដ្ឋតិចសាស (Dallas Texas) សហរដ្ឋអាមេរិក គ្រួសាររបស់លោក ចាន់តារា ជួបប្រទះនូវទុក្ខលំបាកយ៉ាងខ្លាំង ដោយលោកមានឪពុកចុងពិការភ្នែក និងម្តាយចាស់ជរា ថែមទាំងមិនចេះនិយាយភាសាអង់គ្លេស ម្យ៉ាងទៀតលោក និងប្អូនៗក៏មិនទាន់គ្រប់អាយុនឹងចូល

(តទៅទំព័រទី ១០)

ចូលឆ្នាំខ្មែរ ឆ្នាំថោះ ព.ស ២៥៥៥
នៅថ្ងៃព្រហស្បតិ៍ ទី១៤ ខែមេសា ឆ្នាំ២០១១
ខ្មែរប៉ុស្តិ៍ សូមគោរពជូនពរបវរមហាប្រសើរដល់អស់លោកអ្នកអាន
និងប្រជាពលរដ្ឋខ្មែរទាំងអស់ សូមបានសម្រេចប្រកបតែនឹងសេចក្តីសុខចំរើន

# តំនិតជួយសហគមន៍ថ្មីមួយដែលផ្តើមកំណើតនៅលីន

## Lynn: Khmer Community Sports & Arts Volunteer Organization



ដើម្បីលើកតម្លៃអនាគតកូនខ្មែរ និងជនជាតិខ្មែរដែលរស់នៅតាមសហគមន៍ក្នុងតំបន់នានា យើងខ្ញុំបានរៀបចំកម្មវិធីកីឡា និងសិល្បៈខ្មែរដូចជា : ការប្រកួតកីឡា (Sport Tournament), ប្រឡងចំរៀង, ជ្រើសតួឯក, ល្ខោន, រឿងកំប្លែង ។ល។ នេះជាការលើកស្ទួយជ្រោមជ្រែងកូនខ្មែរ និងសង្គមខ្មែរយើងឱ្យជឿនលឿនទៅមុខ ។

កម្មវិធីនេះបើកឡើង គឺផ្តោតលើសមត្ថភាព និងជំនាញរបស់ខ្មែរយើងនីមួយៗដូចជា : ជំនាញ, ភាពរឹងមាំ, បទពិសោធន៍, ទេព្យកោសល្យ, មិនរុញរ៉ា, ក្លាហាន, ដាក់ខ្លួន, អំណត់, (តទៅទំព័រទី ១៤)

# មហាសន្និបាតសហគមន៍ព្រះសង្ឃខ្មែរនៅសហរដ្ឋអាមេរិក

**ដោយ ពិន សំនុន**

•••កាលពីលេខមុន ខ្មែរប៉ុស្តិ៍ បានធ្វើបទសង្ខេបព័ត៌មានស្តីពីទិដ្ឋភាពអង្គប្រជុំការរៀបចំទទួលបដិសណ្ឋារកិច្ចរបស់វត្តបាលីលេយ្យ នៅទីក្រុងហ្វីឡាដែលហ្វៀ កាលពីថ្ងៃសៅរ៍ ទី១៩ និងថ្ងៃអាទិត្យ ទី២០ ខែមីនា ឆ្នាំ២០១១។ លើកនេះយើងសូមលើកពីខ្លឹមសារនៃអង្គប្រជុំមហាសន្និបាតសហគមន៍ព្រះសង្ឃខ្មែរវិញម្តង ។

គុណ ញ៉ែម គឹមតេង ។

ព្រះអង្គ ឫទ្ធីពល ជំនួយការវត្តសង្ឃិការាមទីក្រុងបូស្តុន បានបង្ហាញទស្សនៈនាមុនឱកាសបើកមហាសន្និបាតយថា " ឱកាសនេះជាកិច្ចប្រជុំមហាសន្និបាតប្រចាំឆ្នាំ ២០១០-២០១១ របស់សហគមន៍ព្រះសង្ឃខ្មែរ ជាលើកទី១៨ ដឹកនាំដោយព្រះតេជគុណម្ចាស់ព្រះអង្គ សៅ ឃន ជាព្រះប្រធាននៃសហគមន៍ព្រះសង្ឃខ្មែរ ។ ឆ្នាំនេះមានលក្ខណៈ



មហាសន្និមបាតនេះ រៀបចំឡើងក្រោមព្រះសង្ឃាធិបតីនៃព្រះតេជគុណ សៅ ឃន ធម្មថេរោ និងព្រះសង្ឃាធិបតីរង ព្រះតេជគុណ សែម សាឃឿន។ អង្គប្រជុំនេះដឹកនាំរបៀបវារៈដោយអគ្គលេខាធិការព្រះតេជគុណ ឫទ្ធីពល នាថបណ្ឌិតោ និងព្រះតេជ-

ពិសេសមួយ ដោយព្រះតេជគុណបណ្ឌិត ញ៉ែម គឹមតេង និមន្តមកពីកម្ពុជា ទើបបញ្ចប់និក្ខេបទបណ្ឌិតខាងសាសនា និងបានមកចូលរួមដឹកនាំអង្គប្រជុំមហាសន្និបាតយើងនេះ" នៅលើសំនួរដែល ខ្មែរប៉ុស្តិ៍

(តទៅទំព័រទី ០៥)

# Dealing With Disaster, Tragic, and Striking Events

## ដំណោះស្រាយទាក់ទងនឹងគ្រោះមហន្តរាយ សោកនាដកម្ម និងព្រឹត្តិការណ៍ដែលជាចាតុភូត

**លីន** : ព្រឹត្តិការណ៍ជាច្រើនដែលកំពុងតែកើតឡើង ឬបានកើតឡើងពីអតីតកាល បានបង្កើតជាបរិយាកាសសង្គមដ៏ធំធេង ហើយធ្វើឱ្យសុខភាពរបស់មនុស្សឆ្លើយតបនឹងព្រឹត្តិការណ៍ទាំងនោះយ៉ាងគួរឱ្យព្រួយបារម្ភ។ ព្រឹត្តិការណ៍នៃប្រទេសទុយនេស៊ី ប្រទេសអេហ្ស៊ីបថ្មីៗ បញ្ហាគ្រោះមហន្តរាយ ស៊ូណាមិនៃប្រទេសជប៉ុន គឺនៅចំចំណុចកណ្តាលនៃការចាប់អារម្មណ៍របស់ប្រជាជនគ្រប់ស្រទាប់ ។ រីឯព្រឹត្តិការណ៍ដែលកើតជាប់ផ្ទួនៗគ្នានៅកម្ពុជា មានទាំងសោកនាដកម្មនៃកោះពេជ្រ ដែលមានរដ្ឋប្រហារឆ្នាំ១៩៩៧ មានចលនានយោបាយក្រហម ដែលធ្វើឱ្យបាត់បង់ជីវិតខ្មែរ ប្រជាពលខ្មែររាប់មិនអស់ ។ តើបរិយាកាសរបៀបនេះ សហគមន៍ខ្មែរមានទាំងចាស់ទាំងក្មេង នឹងឆ្លើយតបរបៀបណា?

អ្នកឯកទេសនិយាយថា ជម្ងឺដែលកើតឡើងលើរូបរាងកាយ គឺមានចំនួន៨០% ដែលបណ្តាលមកពីការរំជួលចិត្ត ។ តួលេខដ៏ច្រើននេះ ធ្វើឱ្យយើងនឹកទៅដល់បរិយាកាសនយោបាយដែលនាំឱ្យខ្មែរគ្រប់រូបធ្លាយមកដល់សហរដ្ឋអាមេរិកនេះ នឹងផ្តល់ឱ្យជនជាតិខ្មែរគ្រប់រូបបារម្ភចំពោះសុខភាពខ្លួនស្ទើរគ្រប់គ្នា តែសំណាងល្អដែលនៅប្រទេសនេះ ពលរដ្ឋគេថ្លៃថ្នូ ចេះនឹកទៅដល់ការសង្គ្រោះមនុស្សដែលរងគ្រោះដោយបញ្ហាផ្លូវចិត្ត ហើយយកចិត្តទុកដាក់សិក្សា និងបង្កើតក្រុមអ្នកឯកទេសខាងពិគ្រោះជម្ងឺផ្លូវចិត្តយ៉ាងហ្មត់ចត់។

ប្រទេសទាំងមូលបានមើលឃើញភាពទ្រុឌទ្រោមនៃសុខភាពមនុស្សដែលបណ្តាលមកពីការរំជួលចិត្តនោះ សមាជិកសហគមន៍ខ្មែរជាច្រើនពុំទាន់មើលឃើញចលនាប្រយុទ្ធប្រឆាំងនឹងជម្ងឺផ្លូវចិត្តដ៏ខ្លាំងក្លានេះនៅឡើយទេ ។



**អុទ្រា ជា** បានធ្វើការសិក្សា ហើយបង្ហាញនិក្ខេបទរបស់ខ្លួនជាភាសាអង់គ្លេសដោយសង្ខេបដូចតទៅ :

*Staff Writer: Audria Chea*

From a clinical point of view, many Cambodian throughout the globe somehow emotionally affected by the past three month's events from the uprising Middle East political revolutions to the most recent Japan earthquake and tsunami that lead to massive deaths.

They all began in one momentum and lead to another. The political protest first started in Tunisia December 2010 - January 14, 2011, to Egypt January 25th – February 11th that have struck down the Arabic Nations' dictator leaders whom has held power between over 20 to over 40 years of ruling. The movement followed by the Libyan on February 17th (Continued to page06)




# ពេទ្យធ្មេញសម្រាប់គ្រួសារ ហួ ឌួង

## HOA DUONG, D.M.D., P.C.

**GENERAL DENTISTRY**

គ្រូពេទ្យជំនាញនិងមានបទពិសោធន៍
ច្រើនឆ្នាំក្នុងការពិនិត្យ
ថែរក្សា និងព្យាបាលជម្ងឺធ្មេញទូទៅ





Open: Monday, Tuesday, Wednesday, and Friday
from 10 a.m. – 6 p.m.
Saturday: from 10 a.m. – 4 p.m.
Closed: Thursday & Sunday
We accept all dental insurance & Medicaid

យើងទទួលយកគ្រប់ក្រុមហ៊ុន
ធានារ៉ាប់រងសុខភាព និងការធានារ៉ាប់រង
សុខភាពមនុស្សចាស់

**យើងបើកទ្វារទទួលភ្ញៀវ ៥ថ្ងៃ ក្នុងមួយសប្តាហ៍**
**បិទទ្វារ : ថ្ងៃព្រហស្បត្តិ៍ និងថ្ងៃ អាទិត្យ**

**ទូរស័ព្ទដើម្បីណាត់ជួប (978) 441-1005**
**ម៉ោងធ្វើការពីម៉ោង 10ព្រឹក ដល់ 6ល្ងាច**
**ថ្ងៃសៅរ៍ ពីម៉ោង 10ព្រឹក ដល់ 4រសៀល**
**យើងមានបុគ្គលិកនិយាយភាសាខ្មែរ**

**466 Merrimack Street. Lowell, MA 01854**
**( Near City Hall )/ 978-441-1005**

# Best Choice

## SKIN CARE & SPA

930 Washington Ave. Philadelphia .PA 19147
Tel: 267.519.9908. Fax: 267.519.9913
*Tracey Ling, Manager* **1.866.755.2088**



កម្មវិធីពិសេសជាវសេវាថែរក្សាស្បែកមុខ៥ដង និងថែមជូនពីរដងដោយឥតគិតថ្លៃ និងបញ្ចុះតំលៃ១៥ភាគរយ ទៅលើផលិតផលថែរក្សាស្បែកគ្រប់ប្រភេទ

ការផាត់មុខជាប្រចាំបញ្ចុះតំលៃ២០ភាគរយ

រាល់ការជាវផលិតផលស្បែកមុខ៥ដង នឹងទទួលបានការបន្ថែមមួយដងដោយ ឥតគិតថ្លៃនិងការបញ្ចុះតំលៃ១៥ភាគរយ ទៅលើការជាវផលិតផលថែរក្សា ស្បែកគ្រប់ប្រភេទ ។

Eyelash Conditioner ជាផលិតផលសំរាប់ចិញ្ចើម និងផ្តល់សំណើមដល់រោមភ្នែកជួយឱ្យរោមភ្នែកលូតវែងក្រាស់ និងដុះច្រើនជាងមុន




Obagi Product សំរាប់ព្យាបាលស្បែកមុខខ្មៅមៅតាមវ័យស្បែក រោចម៉ុយ និងស្លាកប្រាវជ្រួញ។ បណ្តុះស្បែកមុខជាថ្មីធ្វើឱ្យមុខមិត់រលោង ។



Plum Delite Plum Fruit
ជាផ្លែ ព្រូនសំរកទម្ងន់



Optrimax Body Gel
សំរាប់លាបលើពោះ និងរាងកាយទាំងមូល ធ្វើឱ្យពោះរៀបស្មើ ។



Beauty Body Gel ជួយបន្តឹងស្បែកឱ្យហាប់ណែននៅត្រង់ដើមដៃ ត្រគាក ភ្លៅ និងក្បាលពោះ។



Portable Steam Sauna ប្រើប្រាស់សំរាប់គ្រួសារ ជួយធ្វើឱ្យចរន្តឈាមដើរបានល្អ ស្បែក បញ្ចេញចោលធូវជាតិពុល និងកំចាត់ចោលជាតិខ្លាញ់ដែលលើស។



Beauty Princess Cream
មកពីប្រទេសបារាំង សំរាប់ធ្វើឱ្យស្បែកស និងព្យាបាលអាចម៍រុយ



All Sun Block SPF 50-88-100-108
សំរាប់លាបការពារស្បែកពីពន្លឺព្រះអាទិត្យ និងមានធាតុអាកាស ក្តៅខ្លាំង



Brightening Cream
ប្រេងលាបឱ្យស្បែកសភ្លឺ



Strech Marks
ប្រេងជួយបមបាត់ស្នាមសង្វាបន្ទាប់ពីកើតមុន



Sakura
ថ្នាំជប៉ុនសម្រាប់បញ្ចុះទម្ងន់




EMU
បំបាត់ស្បែកជ្រីវជ្រួញ




Stormach Massager
ម៉ាស៊ីនម៉ាស្សាពង្រាបក្បាលពោះធ្វើឱ្យពោះរាបស្មើ

Busto Lift ជាឈុតក្រែមសំរាប់លាបលើសុដន់ និងថ្នាំគ្រាប់លេបសំរាប់ពង្រីក និងធ្វើឱ្យសុដន់តឹងណែនល្អមិនធ្លាក់

Pearl Cream
លាបឱ្យស្បែកមុខឱ្យស ហើយទាញឱ្យតឹង មកពីជប៉ុន



Lose Weight Coffee
កាហ្វេធ្វើឱ្យទម្ងន់




Foot Patch
ថ្នាំបិទជើង សម្រាប់បូម ជាតិពុលចេញពីខ្លួន



### ឯកទេសថែរក្សាស្បែក និងសុខភាព

- ជំនាញថែរក្សាផ្ទៃមុខនិងម៉ាហ្សាតាមបែបអឺរ៉ុប
- បច្ចេកវិទ្យាបញ្ចូលក្នុងស្បែកនូវអតិសុខុមនៃគ្រាប់ពេជ្រ
- សំរកទម្ងន់ និងកាត់បន្ថយខ្លាញ់ដែលលើស
- តុបតែងផាត់មុខជាអចិន្ត្រៃ
- ព្យាបាលស្បែកដែលមានពណ៌សម្បុរមិនល្អ
- ព្យាលបាលមុខកើតមុន
- ព្យាបាលស្បែកដែលប្រតិកម្មដោយសារធាតុគីមី
- ធ្វើសក់ជាប្រចាំ



# ភោជនីយដ្ឋាន ណាម វាង ( ភ្នំពេញ )

## Nam Vang Restaurant

**571 Unit#1 Adams Svenue. Philadelphia, PA 19120**
(inside Hong Kong Market) **(215) 742-9488**



ប្រេករាល់ថ្ងៃលោកអ្នកអាចពិសាទឹកក្រឡុកគ្រប់រសជាតិផ្លែឈើ ដូចជា: ទុរេន ឬ អាវ៉ូកាដូ ហើយជាពិសេសមានទឹកអំពៅស្រស់ៗ

**១_មុខជំនាញខាងម្ហូបខ្មែរយ៉ាងចំណាន ដូចជា :**
-គុយទាវភ្នំពេញ
-គុយទាវ ប្រូមី-ខគោ
-មីកន្ទាំង ឆាសាច់គោ
-មីកន្ទាំងឆាគ្រឿងសមុទ្រ
-បាយឆាគ្រប់មុខ
-សាច់គោអាំង ចង្កាក់ជាមួយជ្រក់ល្ហុង

**២_មុខជំនាញម្ហូបវៀតណាមល្អឆ្ងាញ់ ដូចជា :**
-នំបញ្ចុកទឹកត្រីពិសេស
-នំប៉័ងបាតេ ឬសាច់គោអាំង
-ខគោ នំប៉័ង ឬ មី និងគុយទាវ
-បាយសរសាច់ជ្រូកអាំង ឬសាច់មាន់អាំង

**Open 7 days a week from 9a.m-9p.m**
**បើក 7 ថ្ងៃក្នុងមួយអាទិត្យពីម៉ោង 9 ព្រឹក ដល់ 9 ល្ងាច**



# ក្រុមហ៊ុន ទេសចរណ៍

## CENTURY TRAVEL & SERVICE CENTER

904 South 8th Street. Philadelphia, PA 19147
Tel : 215-625-2889; Fax : 215-625-9395
Cell : 267-934-9888; Email : centuryphl@yahoo.com

- បំរើលោកអ្នកដោយគ្រប់ក្រុមហ៊ុនអាកាសចរណ៍ សំរាប់ដំណើរហើរក្នុង និងក្រៅស្រុក
- ជួយរកអ្នកនាំផ្លូវជូនដំណើរទស្សនកិច្ចធ្វើការ
- ពន្យាលិខិតឆ្លងដែនខ្មែរ
- ធ្វើលិខិតអន្តោប្រវេសន៍
- ធ្វើប្រាក់ប្រថាប់ត្រាបញ្ជាក់លើលិខិតជាផ្លូវការ

- Serve all Airlines
- Domestic & Intl. flights
- Tour Arrangements
- Passport Extension
- Khmer Laissez- Passer
- Immigration
- Tourist Visa
- Notary Public

**OFFICE Hours :**
**Mon - Sat 10:00 A.M - 6:00 P.M**
**Sun : 12:00 P.M - 5:00 P.M**

We Speak Khmer, Chinese, Vietnamese
យើងនិយាយភាសាខ្មែរ_ភាសាចិន_វៀតណាម

# ប្រវត្តិចលនារំដោះ រ.ជ.រ.ប.ខ

**ដោយ : ម៉ម យ៉ឹន**

***បន្ទាប់ពីឆ្នាំ១៩៧៩ ដែលកងទ័ពវៀតណាម បានរំដោះកម្ពុជាពីកណ្តាប់ដៃខ្មែរក្រហម ចលនារំដោះជាតិដ៏សំខាន់មួយបានចាប់កំណើតឡើងដើម្បីរំដោះកម្ពុជាពីកណ្តាប់ដៃវៀតណាមជាបន្តទៅទៀត ។***

***លោក ម៉ម យ៉ឹន ដែលជា អ្នកតស៊ូស្ម័គ្រចិត្តក្នុងចលនារំដោះមួយនោះ បានរំលឹកពីសកម្មភាពជាប្រវត្តិសាស្ត្រខ្មែរក្នុងការសរសេររបស់លោក ដែលខ្មែរប៉ុស្តិ៍ មានកិត្តិយសនឹងចុះផ្សាយចែកជូនសាធារណជនជាបន្តបន្ទាប់ដូចតទៅនេះ :***



ប្រវត្តិនេះ បានដកស្រង់ចេញពីប្រវត្តិពិតនៃរណសិរ្សជាតិអ្នកតស៊ូដើម្បីរំដោះប្រជាពលរដ្ឋខ្មែរ ដែលមានឈ្មោះពិតប្រាកដថា "រណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ" មានអក្សរកាត់ថា រ.ជ.រ.ប.ខ រួមជាមួយនឹងកងទ័ពរំដោះប្រជាពលរដ្ឋខ្មែរ ដែលមានអក្សរកាត់ថា ក.ជ.រ.ប.ខ ។

ការលើកឡើងអំពីប្រវត្តិពិតនៃរណសិរ្សជាតិនេះយកមករៀបរៀង ឱ្យកើតជាប្រវត្តិពិត គឺដើម្បីធ្វើជាសេចក្តីរំឭកនឹកឃើញឡើងវិញ អំពីព្រឹត្តិការណ៍ដ៏សំខាន់ ទាក់ទងទៅនឹងគម្រោងផែនការ ជាមហិច្ឆិតាលោភលន់នៃប្រទេសជិតខាងនៅទិសខាងកើត មានឈ្មោះថា ប្រទេសសាធារណរដ្ឋប្រជាធិបតេយ្យវៀតណាម ដែលបានលើកទ័ពចូលវាយលុកលុយដេញកំចាត់ក្រុមខ្មែរក្រហមកម្ពុជាប្រជាធិបតេយ្យ។

ក្រុមខ្មែរក្រហមនេះ បានកាន់អំណាចពីថ្ងៃទី១៧ ខែមេសា ឆ្នាំ១៩៧៥ រហូតដល់ថ្ងៃទី២ ខែធ្នូ ឆ្នាំ១៩៧៨ បានប្រព្រឹត្តអំពើឃោឃៅយង់ឃ្នងព្រៃផ្សៃកាចសាហាវបំផុត សម្លាប់ជីវិតជនជាតិខ្មែរស្លូតត្រង់អស់ប្រមាណជិត ៤លាននាក់ ។

កងទ័ពយួនក្រហមសង្គមនិយមវៀតណាម បានវាយលុកលុយដេញកំចាត់ខ្មែរក្រហមកម្ពុជាប្រជាធិបតេយ្យ បានជោគជ័យទាំងស្រុង នាថ្ងៃទី៧ ខែមករា ឆ្នាំ១៩៧៩ ។

ព្រឹត្តិការណ៍ថ្ងៃទី៧ ខែមករា ឆ្នាំ១៩៧៩នេះហើយ ដែលជាដើមហេតុបណ្តាលឱ្យកើតមានទូវរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ និង "កងទ័ពជាតិរំដោះប្រជាពលរដ្ឋខ្មែរ" ក.ជ.រ.ប.ខ ធ្វើការប្រយុទ្ធតស៊ូ ដើម្បីទាមទារឱ្យកងកម្លាំងទ័ពយួនសង្គមនិយមវៀតណាមដកថយចេញទៅវិញ តាមសន្ធិសញ្ញាអន្តរជាតិ ក្រុងហ្សឺណែវ ឆ្នាំ១៩៥៤ ស្តីពីការការពារឯករាជ្យពេញបរិបូរ និងការពារបូរណភាព និងអធិប-តេយ្យភាពទឹកដីខ្មែរពីសំណាក់វៀតណាម ដែលជាហត្ថលេខីនៃសន្ធិសញ្ញាអន្តរជាតិនោះដែរ ។

ប្រជាពលរដ្ឋខ្មែរ បានឆ្លងកាត់ព្រឹត្តិការណ៍ដ៏មហាសោកនាដកម្មខ្លាំងណាស់ ជាច្រើនលើក ច្រើនគ្រា ចាប់តាំងពីក្រោយបានឯករាជ្យពេញបរិបូរ ថ្ងៃទី៩ ខែវិច្ឆិកា ឆ្នាំ១៩៥៣មកដូចជា :

១- ព្រឹត្តិការណ៍ថ្ងៃទី៣០ ខែកញ្ញា ១៩៦០ គឺជាថ្ងៃកកើតឡើងវិញ នៃក្រុមខ្មែរក្រហមខ្មែរពិតប្រាកដនាំគ្នារត់ចូលព្រៃភ្នំ ភ្នំវាយចាប ខេត្តបាត់ដំបង។

២- ព្រឹត្តិការណ៍ថ្ងៃទី១៨ ខែមីនា ឆ្នាំ១៩៧០ គឺជាថ្ងៃរដ្ឋសភាជាតិត្រូវសម្រេចដកហូតតំណែងប្រមុខរដ្ឋពីសម្តេចនរោត្តម សីហនុ ។

៣- ព្រឹត្តិការណ៍ក្រោយថ្ងៃទី១៨ ខែមីនា ឆ្នាំ១៩៧១ មានភ្លើងសង្គ្រាមបានផ្ទុះឡើងរវាងកងទ័ពយួនព្រៃយៀកកុង ជាមួយកងទ័ពជាតិខ្មែរ ក្រោមការដឹកនាំរបស់លោកសេនាប្រមុខ លន់ នល់ និងទ្រង់ស៊ីសុវត្ថិ សិរិមតៈ ។

៤- ព្រឹត្តិការណ៍ថ្ងៃទី១៨ ខែមេសា ឆ្នាំ១៩៧៥ គឺជាថ្ងៃជោគជ័យកងទ័ពបដិវត្តន៍ប្រជាជនខ្មែរ ខ្មែរក្រហមកម្ពុជាប្រជាធិបតេយ្យ ។

៥- ព្រឹត្តិការណ៍ថ្ងៃទី២ ខែធ្នូ ឆ្នាំ១៩៧៨ គឺជាថ្ងៃកងទ័ពយួនក្រហមសង្គមនិយមវៀតណាម ២ សែននាក់ និងជម្នាញការ ទីប្រឹក្សារាប់ពាន់នាក់ បានវាយប្រហារផ្តួលរំលំអំណាចខ្មែរក្រហមកម្ពុជាប្រជាធិបតេយ្យ ជួយរំដោះសង្គ្រាមជនជាតិខ្មែរ ។

៦- ព្រឹត្តិការណ៍ក្រោយថ្ងៃទី៧ ខែមករា ឆ្នាំ១៩៧៩ មានការបង្កើតរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ បណ្តេញកងទ័ពព្រៃយួនវៀតណាមឱ្យដកចេញពីប្រទេសខ្មែរទៅវិញ ។

ព្រឹត្តិការណ៍ខាងលើនេះ បានបណ្តាលឱ្យប្រទេស និងជនជាតិខ្មែរជួបប្រទះនូបមហាសោកនាដកម្មស្លាប់ព្រាត់ប្រាស់ក្រុមគ្រួសារនៃសង្គមជាតិខ្មែរពាសពេញប្រទេសទាំងមូល ជាពិសេសព្រឹត្តិការណ៍ថ្ងៃទី១៧ ខែមេសា ឆ្នាំ១៩៧៥ ដល់ឆ្នាំ១៩៧៩ ជីវិតជនជាតិខ្មែរស្លូតត្រង់ជិត៤លាននាក់ ត្រូវបាត់បង់យ៉ាងអានោចអធមជាទីបំផុត ។

ចំណែកព្រឹត្តិការណ៍ក្រោយថ្ងៃទី៧ ខែមករា ឆ្នាំ១៩៧៩ ក៏ជាមហាគ្រោះថ្នាក់ប្រកបដោយមហន្តរាយរហូតធ្វើឱ្យរលំរលាយប្រទេស និងជាតិសាសន៍ខ្មែរទៅអនាគមកាលដែរ ។ ពីព្រោះវាជាផែនការរបស់ប្រទេស និងជនជាតិយួនវៀតណាម ដែលគេបានរៀបចំមករាប់រយឆ្នាំរួមមកហើយ ។ ដូច្នេះថ្ងៃទី៧ ខែមករា ឆ្នាំ១៩៧៩នេះ គឺជាថ្ងៃសម្រេចជោគជ័យជាស្ថាពរនៃផែនការវៀតណាមូបនីយកម្មនៅលើប្រទេសខ្មែរនេះហើយ ។

ដោយសារតែកើតមានព្រឹត្តិការណ៍ដ៏មហា-សោកនាដកម្មលើជីវិតជាតិសាសន៍ខ្មែរនេះ ទើបបណ្តាលឱ្យមានសកម្មជនស្នេហាជាតិខ្មែរ ត្រូវតែងើបក្រោកឈរឡើង ប្តេជ្ញា សច្ចាចិត្តបង្កើតចលនាអ្នកតស៊ូជាក្រុមតូចៗ តាំងពីឆ្នាំ១៩៧៥មក ។ លុះមកដល់ឆ្នាំ១៩៧៩ ក៏ចាប់ផ្តើមប្រមូលរួបរួមគ្នាបង្កើតទៅជារណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរដ៏ធំមួយក្រោមការដឹកនាំរបស់លោកតា សឺន សាន រហូតបានទទួលជោគជ័យនាថ្ងៃទី២៣ ខែតុលា ឆ្នាំ១៩៩១ ។



អាស្រ័យហេតុនេះ ដើម្បីរំឭកឡើងវិញនូវមហាវីរភាពនៃអ្នកតស៊ូ ស្នេហាជាតិពិតប្រាកដចំពោះមាតុភូមិ និងប្រជាជាតិសាសន៍ខ្មែរ ដែលត្រូវខ្មាំងសត្រូវរំលោភឈ្លានពាន ប្រកបដោមហិច្ឆិតាលោភលន់ ចង់ពង្រីងទឹកដីមកលើមាតុភូមិខ្មែរ ពុំមានឈប់ឈរសោះ ។ ទើបខ្ញុំលើកយកប្រវត្តិនៃវីរភាពនេះមកតាក់តែងជាកម្រងសកម្មភាពទាំងអស់នៃរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ ផ្សព្វផ្សាយតាមរយៈសារព័ត៌មានខ្មែរប៉ុស្តិ៍ ជាលំដាប់សំដោយ បន្តបន្ទាប់ លុះគ្រាបានចប់ព្រឹត្តិការណ៍ ។ ប៉ុន្តែសេចក្តីស្នេហាមាតុភូមិ និងជាតិសាសន៍ដ៏ឧត្តម ប្រកបដោយមហាវីរភាពពុំអាចបញ្ចប់ទៅបានទេ ។

**សេចក្តីឧទ្ទិស**

រយៈពេលធ្វើការតស៊ូបូរផ្តាច់ ប្រមាណជាង១២ ឆ្នាំនេះ ជនជាតិខ្មែរដ៏ឧត្តម ចាប់ផ្តើមពីថ្នាក់មេដឹកនាំទាំងស៊ីវិល ទាំងយោធា រួមទាំងប្រជាពលរដ្ឋ និងកុលបុត្រ កុលធីតាច្រើនណាស់ បានពលីបូជាជីវិតក្នុងបុព្វហេតុជួយរំដោះ សង្គ្រោះ បំរើ ការពារមាតុភូមិ និងប្រជាពលរដ្ឋខ្មែរ ឱ្យបានជោគជ័យមានឯករាជ្យ សុខសន្តិភាព វឌ្ឍនភាព រីកចំរើនលូតលាស់ មានសិទ្ធិសេរីភាព ដូចជាអរិយប្រទេសនានាក្នុងលោក ។

រូបខ្ញុំផ្ទាល់ដែលបានចូលរួមប្រយុទ្ធដោយសុឆន្ទៈអង់អាចក្លាហាន ជាមួយអ្នកតស៊ូទាំងអស់ ហើយមានជីវិតរស់នៅមកដល់ថ្ងៃនេះ សូមលំអោនកាយសម្រួមចិត្តដោយស្មោះ គោរពដល់មហាវីរភាព និងតិកចិត្តដ៏មហាអង់អាចក្លាហាននៃមហាវីរជនទាំងអស់ ដែលបានពលីជីវិតជនជាតិមាតុភូមិ និងជាតិសាសន៍ខ្មែរ ដោយជីវិត និងលោហិតឈាមស្រស់ដ៏បរិសុទ្ធជាជាតិខ្មែរ ។

យើងខ្ញុំទាំងអស់គ្នា សូមឧទ្ទិសបន់ស្រន់ដល់វត្ថុសក្តិសិទ្ធក្នុងលោក ព្រមទាំងតេជៈបារមីនៃព្រះគ្រប់ព្រះអង្គ សូមជួយដឹកនាំយកព្រលឹងវិញ្ញាណក្ខន្ធនៃមហាវីរជន ទាំងស៊ីវិល ទាំងយោធា ឱ្យបានទៅកើតនៅក្នុងសុគតិភព ដែលជាឋានបរមសុខជារៀងរហូត កុំប្បីប្រែក្លាយទៅជាប្រការដទៃឡើយ ៕

**ក្រុងហ្វីឡាដែលហ្វៀ ថ្ងៃទី១ ខែមករា ឆ្នាំ១៩៩៤**

**ឧត្តមសេនីយ៍ត្រី ម៉ម យ៉ឹន**

**អតីតនាយកទទួលបន្ទុកក្រសួងចលនូបត្ថម្ភ និងជាមេបញ្ជាការការពារសន្តិសុខអគ្គមេបញ្ជាការដ្ឋានកងទ័ពជាតិរំដោះប្រជាពលរដ្ឋខ្មែរ ក.ជ.រ.ប.ខ ។**

ចាប់បើកហើយ

Bright Smiles
DENTAL
724 Chelmsford Street. Lowell, MA 01851
Tel. 978-455-4039. Xuan Duong, DMD.
(Inside Stairway Plaza, Next to Lowe´s)
"Open Early, Open on weekend, Close late"

ពេទ្យធ្មេញសំរាប់គ្រួសារ
- ត្រួតពិនិត្យធ្មេញ ទៀងទាត់ពេល
- សំអាតធ្មេញ
- ជំងឺចិញ្ចាញធ្មេញ
- ដកសសៃធ្មេញ
- ស្រោប-តម្រឹម និងប៉ះធ្មេញ
- ធ្វើធ្មេញឱ្យស
- បំពេញធ្មេញប្រហោង
- ដកធ្មេញ

យើងមានអ្នកនិយាយភាសាខ្មែរ-អង់គ្លេស-ស្ប៉ាញ៉ុល និងវៀតណាម
សូមទូរស័ព្ទ (978) 455-4039 ដើម្បីណាត់ជួបនៅថ្ងៃនេះ

ពិសេសទៅទៀត
អ្នកជំងឺចាយប្រាក់ខ្លួនឯង
$60 សំរាប់សំអាតធ្មេញជាធម្មតា
(លើកលែងតែជំងឺនៅចិញ្ចាញធ្មេញ)
- មិនយកថ្លៃ "ខូ ប៉េយ" សំរាប់ដកធ្មេញ បិទធ្មេញប្រហោង និងសំអាតធុនខ្ពស់ជូនដល់អ្នកមកព្យាបាល ២០០នាក់ដំបូងគេ ។
- យើងទទួលយកគ្រប់ អិនស្វ៊ិន រាប់ទាំង MASSHEALTH ផងដែរ ។

## តមកទំព័រទី ០១ មហាសន្និបាតសហគមន៍ព្រះសង្ឃខ្មែរ...

ចង់ដឹងពីតួនាទីរបស់សហគមន៍ព្រះសង្ឃខ្មែរនៅសហរដ្ឋអាមេរិក និងមហាសន្និបាតរបស់ខ្លួន ព្រះតេជគុណ ឫទ្ធីពល បានមានសង្ឃដីការថា "មហាសន្និបាតនេះ មានតួនាទីតបំណងទំនាក់ទំនងរវាងព្រះសង្ឃ និងព្រះសង្ឃឱ្យរីកចំរើន យល់គ្នាកាន់តែច្រើន កាន់តែរីកធំឡើង ពិគ្រោះពិភាក្សាគ្នារកដំណោះស្រាយ ពិនិត្យមើលថា តើសហគមន៍ធ្វើអ្វីបានខ្លះហើយក្នុងរយៈពេលមួយឆ្នាំកន្លងមកនេះ ហើយទាំងនេះគឺដើម្បីស្វែងរកភាពរីកចំរើនសម្រាប់សហគមន៍ព្រះសង្ឃខ្មែរ ។ យើងនឹងពិគ្រោះដែរថា តើគួរបង្កើតមជ្ឈមណ្ឌលសហគមន៍ព្រះសង្ឃខ្មែរ បើប្រៀបប្រដូចទៅខាងកាតូលិក គឺបង្កើត វ៉ាទីគង់ គ្រប់គ្រងដោយសម្តេច ប៉ាប - អង្គការសហគមន៍



ព្រះសង្ឃខ្មែរនេះកើតឡើងដោយព្រះមហាថេរៈធំៗច្រើនអង្គដំបូងដោយព្រះតេជគុណ អ៊ុង មាន ចៅអធិការវត្តម៉ារីឡែន តែអកុសលព្រះអង្គចូលអនិច្ចធម្មទៅ ហើយភារកិច្ចនេះក៏ធ្លាក់ជាបន្តទៅព្រះមហាថេរៈឯទៀតៗ ហើយនៅពេលនេះព្រះសង្ឃាធិបតីធ្លាក់ទៅព្រះអង្គ សៅ ឃន ធម្មថេរោ ចៅអធិការវត្តត្រៃរតនារាមនៅឡូវែល ក្នុងអាណត្តិ៤ឆ្នាំ ។ អង្គការសហគមន៍ព្រះសង្ឃនេះ ចង់មានតួនាទីរួមជាទីពិគ្រោះផង ជាអង្គការចាត់តាំងផង ដើម្បីរក្សាក្បួនច្បាប់វិន័យឱ្យបានត្រឹមត្រូវតាមក្បួនដែលព្រះសង្ឃត្រូវប្រណិប័ត្ត..." ឆ្លើយតបនឹងសំនួនដែលថា មហាសន្និបាតទី១៨នេះ សង្ឃឹមថានឹងទទួលផលរបៀបណានោះ ព្រះអង្គ ឫទ្ធីពល តបថា "អាត្មាសង្ឃឹមថា មហាសន្និបាតនឹងសម្រេចផ្តល់ទីតាំងទីស្នាក់ការដោយឡែកមួយសម្រាប់សហគមន៍ព្រះសង្ឃ មានព្រះសង្ឃាធិបតី មានអគ្គលេខាធិការធ្វើការទីនោះបាននេះម្យ៉ាង ហើយម្យ៉ាងទៀត ជាមួយវត្តមានព្រះតេជគុណបណ្ឌិត ញ៉ែម គឹមតេង ព្រះអង្គនឹងនិមន្តជាមួយយើងខ្ញុំទៅវត្តនៅរដ្ឋនានា ដើម្បីនឹងធ្វើការតែងតាំងព្រះសង្ឃក្នុងតួនាទីផ្សេងៗសម្រាប់ធ្វើការឱ្យសហគមន៍ព្រះសង្ឃមានភាពចំរុងចំរើន..."។

កិច្ចប្រជុំដែលបានបើកឡើងនាម៉ោង ៨:៣០ ព្រឹកនៃថ្ងៃសៅរ៍ ទី១៩ ខែមីនា បានធ្វើការពិភាក្សា និងសម្រេចជាបន្តបន្ទាប់ អស់រយៈពេល២ថ្ងៃពេញ។ បន្ទាប់ពីកិច្ចពន្យល់ និងពិភាក្សា សេចក្តីសម្រេចចិត្តនីមួយៗបានស្នើឡើងដោយវិធីពិសេសមួយ ដែលព្រះតេជគុណ ឫទ្ធីពល ពិពណ៌នាថា ជាវិធីសម្រេចចិត្តរបស់ព្រះសង្ឃ ដោយព្រះសង្ឃណាមានមតិយល់ស្របសុំឱ្យនៅស្ងៀមស្ងាត់ រីឯព្រះសង្ឃណាមិនយល់ស្របសូមឱ្យលើកដៃ ។ មានចំនួនព្រះសង្ឃតិចតួចបានលើកដៃជំទាស់ ហើយអង្គប្រជុំបានឱ្យដឹងថា ព្រះសង្ឃមួយចំនួនមិនមានសិទ្ធិជាតំណាងអ្នកសម្រេចចិត្ត ថាយល់ព្រម ឬប្រឆាំងនោះទេ ហើយចំនួនព្រះសង្ឃជាអ្នកសម្រេចចិត្តក៏មានចំនួនតិចតួច។ កិច្ចប្រជុំមហាសន្និបាតលើកទី១៨នេះ មានព្រះសង្ឃ ២៦អង្គ ដែលមកពីវត្តប្រមាណ១៥ក្នុងចំណោមវត្តប្រមាណ ១០០ បានមកចូលរួមប្រជុំ ។

មហាសន្និបាតបានចេញសេចក្តីសម្រេចចិត្តនាម៉ោង៥រសៀល នាថ្ងៃអាទិត្យ ទី២០ ខែមីនា ឆ្នាំ ២០១១ មាន៨ចំណុច :

១- រក្សាទុកនូវរចនាសម្ព័ន្ធគណៈដឹកនាំសហគមន៍ព្រះសង្ឃខ្មែរសហរដ្ឋអាមេរិក ដើម្បីដឹកនាំការងារបន្តទៀត ។

២- បន្តការអនុវត្តនូវផែនការទាំង៥ចំណុច ដែលបានដាក់ចេញនៅក្នុងមហាសន្និបាតសង្ឃលើកទី១៧ ។




៣- រៀបចំឱ្យមានរចនាសម្ព័ន្ធគ្រប់គ្រងព្រះសង្ឃតាមក្រុង-រដ្ឋនីមួយៗ សម្រាប់ដឹកនាំ និងសម្របសម្រួលការងារជាមួយគណៈដឹកនាំសហគមន៍ព្រះសង្ឃខ្មែរ ។

៤- ជម្រុញការប្រមូលមូលនិធិសមាជិករបស់សហគមន៍ព្រះសង្ឃខ្មែរ ឱ្យដំណើរការឡើងវិញ ដើម្បីបម្រើសកម្មភាព និងបង្កើតមូលនិធិវត្តសម្រាប់ដោះស្រាយបញ្ហាផ្សេងៗរបស់វត្ត និងសម្រាប់សកម្មភាពមនុស្សធម៌គ្មានព្រំដែន ។

៥- និមន្តព្រះសង្ឃដែលមានសមត្ថភាពក្នុងផ្លូវលោក និងផ្លូវធម៌ ជួយបម្រើការងារនៅក្នុងសហគមន៍ព្រះសង្ឃខ្មែរ ដើម្បីធ្វើការងារឱ្យមានប្រសិទ្ធភាព ។

៦- ជម្រុញឱ្យមានសាមគ្គីភាព និងឯកភាពរវាងព្រះសង្ឃខ្មែរនៅក្នុងសហរដ្ឋអាមេរិក នៅព្រះរាជាណាចក្រកម្ពុជា និងនៅប្រទេសនានាលើពិភពលោក។

៧- បង្កើតមជ្ឈមណ្ឌលមួយដោយឡែកពីវត្តសម្រាប់សហគមន៍ព្រហសង្ឃខ្មែរបំពេញការងារដោយឯករាជ្យ ។

៨- មហាសន្និបាតសហគមន៍ព្រះសង្ឃខ្មែរសហរដ្ឋអាមេរិកលើកទី១៩ នឹងត្រូវលើកឡើងនៅក្នុងកាលបរិច្ឆេទ និងទីកន្លែងសមស្របមួយ ដែលត្រូវចំថ្ងៃឧបោសថ ១៥កើតឬ១៥រោច នៃប្រក្រតិទិនខាងចន្ទគតិ ដើម្បីព្រះភិក្ខុធ្វើឧបោសថកម្មតាមព្រះវិន័យ ។

(នៅមានតលេខក្រោយ)

KhmerPost USA, LLC
East Coast Publication

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im,**
**Audria Chea, Sovan Heng**

*Contributed Writers:*
**Mam Yin, Kim Phien,**
**Lanica Angpak, & Dannely Sam**
KhmerPostLowell@gmail.com

**Soben Pin**
*Marketing Director*
KhmerPostUSA@gmail.com
**267-253-3947**
**Sam Khoeun**
*Sales Consultant*
**(781) 244-0522**

*Design Staffs:*
**Leang Heng & Doch Vuthy**
~~~~~
KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English.
It published twice a month in Pennsylvanian & Massachusett.
~~~~
Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year. Money order or check is accepted and made payable to:
U.A.M.G.
P.O. Box 24357
Philadelphia, Pa 19120
~~~
The Khmer Post has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

ART OF WELLNESS CENTER

Art of Wellness
"Integrating Holistic Healthcare for the Mind, Body, and Spirit."
(215)305-2238
www.artofwellnesscenter.com

មន្ទីរសុខភាព "Art Wellness" ទទួលព្យាបាលបញ្ហាផ្លូវចិត្ត នឹងធ្វើទៅតាមទម្លាប់ និងជំនឿរបស់លោកអ្នក ដោយប្រើរបៀបបច្ចេកទេសអាស៊ី និងបច្ចេកវិទ្យាបស្ចឹមប្រទេស ។
ចំពោះលោកអ្នកមានការលំបាកណាមួយដូចចំណុចខាងក្រោម :

- ធ្លាក់ទឹកចិត្ត DEPRESSION
- ការថប់អារម្មណ៍ ANXIETY
- ភាពតានតឹង STRESS
- មានកំហឹងច្រើន ANGER MANAGEMENT
- ឈឺខ្លួនប្រាណគ្រប់កន្លែង PAIN MANAGEMENT
- មានវិបត្តិក្នុងគ្រួសារ FAMILY ISSUES
- ការញៀន និងអ្វីមួយ ADDICTION ISSUES
- សុខភាពស្ត្រី WOMEN'S HEALTH

ទទួលព្យាបាលគ្រប់វ័យ

ទទួលព្យាបាលគ្រប់វ័យ | TREATMENT TYPE
- ប្រើម្ជុលឥតថ្នាំ • Acupuncture
- ចាប់សរសៃ • Acupressure
- ចិត្តវិទ្យា • Psychotherapy
- យោគ/ភាវនា • Yoga/ Meditation

វេជ្ជបណ្ឌិតនឹងអ្នកជំនាញការមានបទពិសោធន៍ច្រើនឆ្នាំនៅប្រទេសចិន និងនៅសហរដ្ឋអាមេរិក ។
សូមអញ្ជើញទូរស័ព្ទ ឬមកមន្ទីរពេទ្យសុខភាពយើងខ្ញុំ ដើម្បីពិគ្រោះវិធីព្យាបាល

ART OF WELLNESS CENTER
647 BAINBRIDGE STREET,
PHILADELPHIA, PA 19147
215-305-2238
ភាសាខ្មែរទាក់ទង ប៊ុន រ៉ាត់ : 267-242-8526

- Allergy Testing & Elimination
- Weight Managerment for Adult & Children
- Diabetes
- High Blood Pressure
- High Cholesterol Level Issue
- រកប្រតិកម្មនឹងធាតុអ្វីមួយ ហើយបំបាត់វាចេញ
- គ្រប់គ្រងទម្ងន់សម្រាប់ចាស់និងក្មេង
- ទឹកនោមផ្អែម
- លើសសម្ពាធឈាម
- លើសកូឡេស្តេរ៉ុល
- Insomnia (Difficulty Sleeping)
- Facial Acupuncture (reduce wrinkles)
- Nutrition Consultation (Free)
- Genetic Testing
- Feeling Tired & Weak
- We Accept AETNA & United Healthcare
- ដេកមិនលក់
- ប្រើម្ជុលព្យាបាលលើផ្ទៃមុខ (បន្ថយភាពជ្រីវជ្រួញ)
- ពិគ្រោះពីម្ហូបអាហារ (មិនយកកំរៃ)
- ធ្វើតេស្តអំពីពូជ
- អស់កម្លាំង មិនស្រួលខ្លួន
- យើងទទួលយក AETNA និង UNITED HEALTHCARE
~~~

# សារថ្វាយព្រះឥន្ទ្រនាឆ្នាំថោះ ព.ស ២៥៥៥

**ដោយ : គ្រូធំ**

សូមក្រាមថ្វាយបង្គំពីស្រុកអាយ
គ្មានអ្វីជាជង្វាយទេព្រះអង្គ
យើងខ្ញុំបុត្រកំព្រាគ្មានទីពឹង
មានសល់ព្រះអង្គជាឪម៉ែ ។
សូមទ្រង់មេត្តាប្រណីសណ្ដោស
សង្គ្រោះខ្មែរម្ដងចុះព្រះគុណថ្លៃ
ខ្មែរលិចម្ដងនេះពិតជារលាយ
ទឹកដីខ្មែរចុងក្រោយពាយទៅគេ ។

យើងខ្ញុំសូមលំអោនកាយថ្វាយបង្គំសូមឱ្យលោកអាចារ្យធំជាតំណាងនាំសារឱ្យយើងខ្ញុំទៅថ្វាយព្រះអង្គនាឋានព្រះឥន្ទ្រនៅខ្ពស់ផុតលោក សូមព្រះអង្គមេត្តាបើកទិព្វចក្ខុទតចុះមកនគរកម្ពុជា នាឆ្នាំថោះនេះប្រញាប់ឱ្យទាន់ ! យើងខ្ញុំពិតជាមានគ្រោះធំហើយព្រះអង្គ គ្រោះថ្នាក់ម្ដងនេះពិតជាកូនចៅព្រះអង្គជំនាន់ក្រោយគ្មានទឹកដីរស់នៅ ដូចបងប្អូនចាមបាត់នគរចំប៉ាទៅក្នុងដៃពួកដាយវៀតមិនខាន់យ៉ាងនោះដែរ ។

ខ្ញុំព្រះអង្គជាអាចារ្យធំសូមក្រាបថ្វាយបង្គំក្រោមល្អងធូលីព្រះបាទ! សូមបង្គំទូលថា : ព្រះអង្គធ្លាប់បានព្រះមេត្តាប្រោសប្រណីព្រះរាជទានបុត្ររបស់ព្រះអង្គឱ្យមកគ្រងរាជនគរយើងខ្ញុំនេះ ព្រមទាំងបានចាត់ឱ្យពិស្ណុការណ៍ចុះមញ្ចកសាងប្រាសាទថ្វាយបុត្រព្រះអង្គនាក្រុងអង្គរ ដើម្បីជារាជ្យវាំងជ័យប្រែក្លាយនគរកម្ពុជាជាមហានគរ ។ ពិតដូច្នេះមែន នគរបានថ្កុំថ្កើនរុងរឿង ហើយបានក្លាយជាមហាណាចក្រលើផែនដីសុវណ្ណភូមិ ល្បីល្បាញខ្ទរខ្ទារលើពិភពលោកនាសម័យអង្គរនោះឯង ។ ព្រះរាជាទាំងឡាយដែលមានខ្សែស្រឡាយជាពូជពង្ស "វរ័ន្ម" ខំកសាងនគរ អាងទឹក (បារាយ) ជីកព្រែក សង់ស្ពានថ្មល់សាងប្រាសាទច្រូងច្រាងរាប់ម៉ឺនលើផ្ទៃដីនៃមហានគរបន្សល់ទុកឱ្យកូនចៅដល់សព្វថ្ងៃ និងនៅលើតីកដីដែលបានទៅគេដ៏សន្ធឹកសន្ធាប់នោះទៀតផង ។

តែតំណរតមកនគរក្មេងៗកើតក្រោយ គេលោភលន់នឹងភោគទ្រព្យរបស់ខ្មែរ ណាមួយខ្មែរចេះតែកសាង ពុំសូវពុំប្រសព្វខាងការពារ ណាមួយចេះតែចង់ធំម្នាក់ឯង ពុំចេះរំលែកអំណាច ហើយខំតែកាប់សម្លាប់គ្នាឯង ធ្វើឱ្យបាត់បង់អស់នូវកុលបុត្រខ្លឹមនៃជាតិឯង ទុកចិត្តសត្រូវជាងសាច់ឈាមខ្លួន ហេតុនេះហើយមហាអាណាចក្រខ្មែររលាយរលត់បន្តិចម្ដងៗរហូតដល់ក្រុងអង្គរលិចបាត់ទៅក្នុងព្រៃស្មសានច្រើនរយឆ្នាំ ស្ដេចខ្មែររវល់តែនឹងអំណាច និងប្រយោជន៍ផ្ទាល់ខ្លួន មានស្រីស្រា កញ្ឆា អាភៀន គ្មានទឹកដល់ការការពារប្រទេសជាតិមាតុភូមិរបស់ខ្លួនឱ្យបានត្រឹមត្រូវឡើយ ហេតុដូច្នោះហើយទឹកដីខ្មែរដែលបាត់បង់ទៅមិនបានគិតទាមទារមកវិញទេ ទោះបីឱកាសហុចឱ្យយ៉ាងណាក៏ដោយ បណ្ដោយឱ្យបាត់បង់ទៅទៀតដោយកំហុចដដែលៗ។ រហូតដល់ពូជពង្សវរ័ន្ម បានបាត់បង់ក្រោមលំពែងរបស់អ្នកក្លាហានជ័យ ជនជាតិសម្រែ មានស្នាដៃខ្លាំងពូកែស្មានអាចកែប្រែប្រវត្តិសាស្ត្រខ្មែរទៅរកទម្រង់ដើមដ៏ល្បាញល្បី... មួយរយៈដំបូងឃើញថា គួរឱ្យសង្ឃឹមមែនដោយសារតាជ័យ ឬតាត្រសក់ផ្អែមពិតជាពូកែក្លាហានរៀបចំកែប្រែកសាងព្រះរាជាណាចក្រសារឡើងជាថ្មី ។ តែអនិច្ចារ្យវាសនាខ្មែរងើបងើបមិនបានប៉ុន្មានក៏ជំងឺចាស់រើឡើងវិញ សត្រូវរុករានឈ្លានពានដណ្ដើមភោគទ្រព្យ និងទឹកដីខ្មែរពីសំណាក់ប្រទេសក្មេងៗ កើតក្រោយតែពោរពេញដោយមហិច្ឆិតាលោភលន់ដូចយួន និងសៀមនេះ ។ ម្យ៉ាងទៀតតំណរពូជពង្សតាត្រសក់ផ្អែម ក៏សប្បាយនឹងប្រយោជន៍ផ្ទាល់ខ្លួន សម្លាប់គ្នាឯង ដណ្ដើមស្រីញីលែងគិតដល់ប្រទេសជាតិ ។ កុននឹងការចោមរោមហែកហួរពីប្រទេសជិតខាង ព្រះបាទអង្គឌួងទ្រង់បានតម្រិះត្រូវ គឺបានទាក់ទងស្ដេចបារាំងសែសមកជួយការពារជាអាណាព្យាបាល តែត្រូវបានតែត្រឹមណឹងរួចលែងដៃឱ្យបារាំងធ្វើអីក៏ធ្វើទៅ ។ ប្រសិនបើស្ដេចខ្មែរទាក់ទងបារាំងបានមកដោយលំបាកយ៉ាងណឹងហើយចេះយកចិត្តគេ ចេះផ្ដល់ផលប្រយោជន៍ឱ្យគេក្នុងនាមយើងជាម្ចាស់នគរ ពិសេសគួរតែចេះដឹកនាំឱ្យកូនចៅប្រជានុរាស្ត្រខំប្រឹងរៀនសូត្រឱ្យចេះដឹងឱ្យបានច្រើនបំផុត ចៀសវាងក្ដីល្ងង់ខ្លៅ គឺអវិជ្ជាសមម្លេះប្រជានុរាស្ត្រខ្មែរឆ្លាតវៃទាំងអស់គ្នាចេះរកមធ្យោបាយប្រែគេឱ្យធ្វើការឱ្យយើងយ៉ាងគត់មត់បំផុត ម្លេះសមអាណាខេត្តដែលបាត់បង់ទៅក្នុងកណ្ដាប់ដៃចោរយួន និងសៀមត្រូវតែបានមកវិញ

(មានតនៅលេខក្រោយ)

(Continued from page 01 )

## Dealing With Disaster,...

that continues with the on-going unrest and deadly protest in the effort to bring downits dictator leader of 42 years in ruling. Last, the incredible power of nature took place in Japan with an 8.9 magnitude earthquake, which struck the coastal Japan on March 11th, which spawned a powerful tsunami that lead to at least 10,000 deaths and devastated millions.

These events may cause many Cambodians anxiety about the world around them because of their great share of experiences of the Khmer Rouge Killing Field in the 70s; the invasion of Vietnam that result in millions of Cambodians becoming refugees. Followed by the coup de tat' in 1997 and the most recent unforeseen tragedy of "stampede" on November 23rd, 2010, during the Cultural Annual Festival in Phnom Penh, Cambodia that caused hundred deaths and thousands injured.

These historical events determined and created unsettling emotional, mental, and physical climates in all adult, young adult, teen, and children living in each of these eras. The described climates, in no doubt, has a secondary effect on the children and teen today, as they see pictures in the news, overhear stories of destruction, despair, and notice the anxiety in adults.

If you find the events described above caused you anxiety, feeling unease and unsettle, brought nightmares and flashback of past events you've witnesses and experiences, caused overwhelming concerns and fears for yourself, your family, and children, you may want to consider professional counseling to deal with your reactions.

Why Professional Counseling?

1. To work on dealing and freeing yourself from traumatic experiences you've encountered throughout your life that caused you from moving forward.

2. Therapist/Counselor can offer skills that can assist you with problem solving techniques to cope with what you may struggle with.

3. Help you find a more happy and healthier you through positive techniques in fostering your emotional, mental, physical, and behavioral aspects affecting your daily life.

Why Professional Counseling Important?

1. If you are parents understand that how you appear to your children emotionally, mentally, physically, and behaviorally on a daily basis have profound influence on them. They mirror how you carryout and respond to all life aspects. They will observe not just what you say, but what you do.

2. Children need and absorb wisdom from you as parents, consciously and sub-



Parents assisting a child to build his walking resiliency

consciously. They grow into the kind of people they will become at least in part by how you guide them through their questions, fears, and concerns.

3. The most important thing you can do for your children is to be there, listen, be your most thoughtful selves, and respond to their emotional and educational needs. You can offer a place to teach them about the world that they will inherit.

Your Responsibility to Your Children

1. You have a responsibility as parents and teachers.

2. Recognize that every child is an individual (in the Cambodian culture parents tend to compare a child whom they feel present poorly with "children" whom they feel a better accomplisher in a certain area of development among siblings, relatives, and or acquaintances of similar age). This is not a good concept to teach any children to better achieve in life. In fact you do the opposite, which is presenting hurtful insult to a child who is in need of assistant.

3. In dealing with tragic events and natural or man made disasters; as parents you have the responsibility to reassure children of their own safety and security. For young children in times of unease, the strength of your calm presence and simple reassurances help to make the world a safe and manageable place, as adults determine the emotional climate for young children.

4. Limit the children's exposure to horrific images by reducing exposure to the media.



Counseling session

5. Help children participate in global events in ways that are meaningful to them.

Some Suggestions to Answering Children's Questions about any Tragic Events or Disaster

Be prepared with the facts of the situation and the appropriate language; by consider key points for talking to any child:

1. Modify your response to the individual child. Keep in mind the child's age, personality and level of interest.

2. Ask what the child knows and is thinking about. Answer their questions without over-explaining or providing more details than necessary.

3. Help them understand that the natural world is a source of both life and struggle.

4. Help older children understand about the world that they are seeing and using it as an opportunity to discuss issues of culture, poverty, global responsibility and geography.

It is important to note that children learn empathy and compassion by taking actions that help others and watching parents who model kindness, generosity, and compassion.

Good luck taking a chance to better yourself emotionally, mentally, and physically. Last week I learned from a conference I attended and presented that 80% of all physical illness is cause by stress. Know that the professional with rightful skills are available to assist when you are ready. It is noted that a healthier, confidence, and stronger parents raise healthy, confidence, resilience, and knowledgeable children. Some contacts in your area include below facilities have culturally competance Therapists and Medical Health providers.

Lowell, MA
Meta Health Center of Lowell
Community Health Center
135 Jackson Street
Lowell, MA 01852
Tel. 978-441-1700

Lynn, MA
Lynn Community Health Center
694 Western Ave. Second Floor
Lynn, MA 01905
Tel: 781-596-3500

Revere, MA
North Suffolk Mental Health Association
The Southeast Asian Community Clinic-
265 Beach Street
Revere, Ma 02151
Tel: (617) 912-7700

Philadelphia, PA
The Wedge Medical Center, P.C
4913 N. Broad Street
Philadelphia, Pa 19141
Tel: 215-329-3200

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING

(តមកពីលេខមុន)

រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

●តាមបទពិសោធន៍ផ្ទាល់ខ្លួនខ្ញុំឃើញថា បើយើងមានសតិដឹងហេតុការណ៍ទាំងនោះ មានន័យថា យើងបានរួចរំដោះផុតពីទិដ្ឋភាពខ្មៅងងឹតនោះហើយ ។ ពេលកំពុងតែខឹង បើយើងដឹងខ្លួនថាកំពុងតែខឹងនោះ ថាមពលនៃកំហឹងនឹងរដកសាបរលាបបន្តិចម្ដងៗពីផ្ទៃចិត្តយើងៗនឹង បានរួច រំដោះ ពេលខណៈនោះឯង (ធូរស្រាលពីកំហឹង Instantly, immediately) ។

សូមពិសោធន៍ជាមួយខ្ញុំ ។ ពេលអ្នកមានកំហឹង សូមតាំងអារម្មណ៍ឱ្យស្ងៀមមួយភ្លែត ហើយតាំងសំណួរសួរខ្លួនឯង ដូចជា « នរណាខឹង ? ឬកំហឹងមកពីណា ? ឬកំហឹងមានទ្រង់ទ្រាយដូចម្ដេច ? » ។ សូមកុំប្រឹងរកចម្លើយគ្រាន់តែពិនិត្យអំពីការប្រែប្រួលបានហើយ (Just watch within, that's it ) ។ សំណួរជាមធ្យោបាយទាញសតិឱ្យមើលទៅក្នុងខ្លួនប៉ុណ្ណោះ ។ អ្នកនឹងធូរស្បើយពីកំហឹងភ្លាមៗនោះពុំខានឡើយ ។

នេះជាការវិវត្តន៍មួយដ៏អស្ចារ្យការប្រែប្រួលមួយដ៏អស្ចារ្យ ការរួចរំដោះមួយដ៏អស្ចារ្យការរកឃើញមួយដ៏ចម្លែកអស្ចារ្យដែលខួរក្បាលមនុស្សគិតពុំដល់ គិតពុំយល់ មានតែការពិសោធន៍ផ្ទាល់ប៉ុណ្ណោះទើបអាចជ្រាបដឹងបាននេះជាបញ្ហាថ្នាក់កំពូលក្នុងព្រះពុទ្ធសាសនា ។

គួរកត់សំគាល់ថា សតិដឹងនេះត្រូវឋិតក្នុងភាពបរិសុទ្ធ មានន័យថា ពុំដឹងតាមរយៈខួរក្បាល តាមម៉េម៉ូរីឡើយ ។ ពុំដឹងតាមការពិចារណា ការប្រៀបធៀប ការវិនិច្ឆ័យ ការសរុបយោបល់ឡើយ ។ ពោលគឺដឹងពីបណ្ដូលខ្លួនយើងតែម្ដង (From our being not from our thinking process ) ។ ន័យម្យ៉ាងទៀត យើងមានសតិដឹងដោយមើលពីខាងក្នុងបណ្ដូលខ្លួនយើងមក ពុំឆ្លងតាមរយៈខួរក្បាលឡើយ (ពុំអនុញ្ញាតឱ្យម៉េម៉ូរីជ្រៀតជ្រែក ឬធ្វើអន្តរាគមតាមបែបផែនណាឡើយ) ។

ការពង្រីកសតិដឹងក្នុងខ្លួន (Recognition) នេះជាគន្លឹះបំផុតក្នុងវិធីអង្គុយឬតាំងសមាធិ ។ ការដែលយើងម្នាក់ៗហាត់អង្គុយសមាធិមួយថ្ងៃពីរពេល គឺហាត់ហ្វឹកហ្វឺនពង្រីកខឿនសតិដឹង (Awareness) នេះពោលគឺធ្វើយ៉ាងណាឱ្យសតិដឹងនេះរីកពណ្ណរាយឡើងៗ ។ សតិដឹងនេះមានប្រភពពីកុងស្យន្សិសដ៏បរិសុទ្ធ (Pure consciousness–turya) (ដូចបានបរិយាយពីមុនស្រាប់ផ ។

សតិដឹងជាមូលដ្ឋានសំខាន់បំផុតសំរាប់រំដោះចិត្តមនុស្សឱ្យរួចផុតពីភាពសៅហ្មងទាំងឡាយពីកំហឹង ទុក្ខព្រួយ ភ័យខ្លាច ក្រៀមក្រំ ច្រណែន ការខ្មាស់អៀន ការញៀន ។ល ។

**គោលការណ៍ ការព្រមទទួលយក ឬការសុខចិត្ត (Acceptance ) :**

សូមចូលរួមពិនិត្យឥរិយាបថមនុស្សម្នាក់ ដែលដើរឆ្លងកាត់ភូមិមួយ ។ ដោយចៃដន្យ ជននោះដើរជាន់ភក់តាមផ្លូវ ។ ឥរិយាបថពីរយ៉ាងដែលអាចកត់សំគាល់ :

**០១-** ជននេះមានប្រតិកម្មសំដែងចេញជាការខឹងនឹងខ្លួនឯងដើរពព្លាក់ពព្លើពុំពិនិត្យ នាំឱ្យជាន់ភក់ ឬខឹងអ្នកដទៃពុំទទួលខុសត្រូវថែទាំផ្លូវ ទុកឱ្យមានភក់ក្រខ្វក់ ហើយក៏ជេរប្រទេចផ្ដាសារ ដោយកំហឹងបិទបាំង ខកខានពុំបានមើលមុខក្រោយជ្រុលជ្រោះជាន់ភក់កាន់តែជ្រៅ ។

**០២-** ជននេះមានឥរិយាបថទទួលយក ឬសុខចិត្តពុំប្រកែកប្រណាំងនឹងវាសនាដែលត្រូវប្រឡាក់ភក់ ។ គេគិតថា នេះជារឿងហួសទៅហើយនេះជាហេតុការណ៍ (It is the fact ) ។ អារម្មណ៍និងចិត្តគេស្ងប់នឹងនរ ។ គេមានឱកាសនឹងពិនិត្យសភាពការណ៍បានច្បាស់លាស់ ដកជើងពីភក់ហើយជូតតាមសំរួល រួចបន្តដំណើរទៅទៀតទុកឱកាសឱ្យខួរក្បាលទំនេរសំរាប់គិតគូរអំពីរឿងផ្សេងៗដែលត្រូវដោះស្រាយចំពោះមុខ ។

គឺក្នុងឥរិយាបថទីពីរនេះហើយ ដែលអ្នកប្រតិបត្តិសមាធិត្រូវប្រកាន់យក ។ ពាក្យទទួលយក ឬសុខចិត្តតាមវាសនានេះ បើមើលសើៗពីក្រៅហាក់ដូចបង្ហាញចេញចំណុចអវិជ្ជមាន ព្រោះបណ្ដោយខ្លួនពុំចាប់កាន់ដោះស្រាយឬព្រងើយកន្តើយ ។ បើពិនិត្យឱ្យជ្រៅ យើងឃើញប្រភេទជនទី២មានសភាពចាស់ទុំ ដោះស្រាយបញ្ហាបានល្អជាង ។ តាមពិត យើងទទួលយកឬសុខចិត្ត ពុំមានន័យថា យើងព្រងើយកន្តើយឡើយ ។ ផ្ទុយទៅវិញរក្សាភាពស្ងៀមស្ងាត់នឹងនរ ដើម្បីពិនិត្យ និងដោះស្រាយបញ្ហាជាជំហានៗបានល្អជាង ។ តាមពិតការទទួលយក ឬសុខចិត្តនេះគឺគ្រាន់តែជាវិធីម៉េតូដ (Technique ) ធ្វើឱ្យស្ងប់ចិត្តប៉ុណ្ណោះ ។ សូមកុំភ្លេចថា ក្រោយពីទទួលយកហើយ ឬសុខចិត្តហើយ ត្រូវសួរខ្លួនឯងថា តើមានកិច្ចការអ្វីត្រូវធ្វើ ដើម្បីដោះស្រាយចំពោះមុខ ជាជំហានដំបូង? ការរីកចំរើននឹងចាប់ចេញដំណើរពីចំណុចនោះតែម្ដង ។

គោលបំណងនៃការអង្គុយសមាធិ គឺការស្វែងរកចិត្តស្ងប់ សន្តិភាព ក្នុងចិត្ត ការដឹកនាំសតិឱ្យហួសចេញអំពីចលនាខួរក្បាលហួសអំពីម៉េម៉ូរី (Go beyond the human mind, go beyond human memory) ។ នៅពេលអង្គុយសមាធិអ្នកប្រតិបត្តិតែងប៉ះទង្គិចនឹងអារម្មណ៍នឹងរឿងរ៉ាវជាច្រើន : រឿងអតីតកាល ការស្រមៃ កំហឹង ភ័យព្រួយ ការគិតគូរអំពីអនាគត ។ល ។ បើបន្តធ្វើប្រតិកម្មទៅនឹងរឿងរ៉ាវទាំងអស់នោះ គេនឹងជាប់ផុង លង់ក្នុងអារម្មណ៍ទាំងនោះ ហើយភ្លេចការងារសមាធិទាំងស្រុង ។ ឧបករណ៍មួយដ៏ស័ក្ដិសិទ្ធ គឺការទទួលយក ឬការសុខចិត្តចំពោះមុខ រូបភាពទាំងអស់នោះ ទាំងរឿងល្អ ទាំងរឿងអាក្រក់ ទាំងឈ្នះ ទាំងចាញ់ ទទួលទាំងអស់ ពុំប្រកែកប្រណាំង ពុំធ្វើប្រតិកម្មឡើយ ។ បើកំហឹងមកដល់បាទខ្ញុំទទួល ។ បើរឿងរ៉ាវល្អមកដល់បាទខ្ញុំទទួល ។ សមនឹងពាក្យបូរាណ ពោលថា : «ចាញ់បានជាព្រះ ឈ្នះបានជាមារ» ។ ធ្វើដូច្នេះតៗទៅ :

**-ទី១** យើងបង្ហាត់ចិត្តអប់រំចិត្តឱ្យតាំងនៅក្នុងសភាពស្ងប់ស្ងាត់ យើងបណ្ដុះទម្លាប់ថ្មីឱ្យខ្លួន ទម្លាប់នេះ

(នៅមានតលេខក្រោយ)

ឱសថស្ថាន TRX Pharmacy
Rx
5520 Whitaker Ave Unit C, Philadelphia, PA 19124
Tel: 215.288.8701 | Fax: 215.288.8702
Hours : Mon-Fri: 9:30 AM to 6:30 PM Sat-Sun: 10 AM to 4 PM

ម្ចាស់ហាង : ស៊ីវ អេង

- យើងទទួលយកអ៊ិនស្ទួរិនស្ទើរតែទាំងអស់
- កន្លែងចតឡានធំទូលាយ
- អាចយកថ្នាំទៅជូនដល់ផ្ទះ
- សេវាត្រឹមត្រូវច្បាស់លាស់ មានវិជ្ជាជីវៈ ធ្វើការលឿន
- មានគម្រោងបង់ថ្លៃពិសេស សម្រាប់ "ខូប៉េយ" ដែលមានតម្លៃខ្ពស់
- មានរង្វាន់ បើយកវេជ្ជបញ្ជាមកទិញថ្នាំ
- ពិសេស: មានជូនកំរៃ $5 សម្រាប់អ្នកមកទិញថ្មី ដែលមានការផ្ទេរវេជ្ជបញ្ជា

Diabetes Test Strips ម្ជុលសំរាប់ធ្វើតេស្តទឹកនោមផ្អែម
$32.99/50ct $32.99/50ct $42.99/50ct $85.99/100ct $32.99/50ct $45.99/50ct $38.99/50ct $85.99/100ct
$12.99 $17.99 $12.99
ចុះថ្លៃ 25% →
Move Free, Move Free, Arthro, PREVACID
Ensure
ចុះថ្លៃ 20% →
alli, Salonpas, Prilosec, TYLENOL
6 Bottles = $50.00

**ពិសេស** : ជូនម្សៅអិនស្វមួយកំប៉ុងពេលទិញតាមវេជ្ជបញ្ជា៨មុខមានពិសេសសំរាប់ភ្ញៀវដែលគ្មាន អិនស្វិន មានថ្នាំជេណេរិត ច្រើនរយមុខតម្លៃ $7.99 សំរាប់ ៣០ថ្ងៃ ថ្នាំ អនតាយបាយ៉ូទិក ដូចជា Amoxicillin, Cephalexin, Pencillin តម្លៃ $4 តាមវេជ្ជបញ្ជាមានលក់របស់ក្មេងលេងជាច្រើនទៀត



ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១ ខែមេសា ឆ្នាំ២០១១

# 44 Homes in Russei Keo Razed by Court Order

By Saing Soenthrith
The Cambodia Daily

A final appeal by residents in Phnom Penh's Russei Keo district to Prime Minister Hun Sen and his wife, Bun Rany, was for naught, as they tearfully watched their homes demolished yesterday.

Residents called out the first couple's name before excavators and a bulldozers razed 44 homes in Tuol Sangke commune's Tuol Kok village, carrying out a 2007 Supreme Court order awarding the land to a senior government minister.

The prolonged dispute between the residents and Senior Minister Khun Haing, deputy head of the National Authority for Land Dispute Resolution, is now over, said district governor Khlaing Huot.

"The land belongs to Mr Khun Haing, because he has the land title," Mr Huot said.

Mr Huot and deputy Phnom Penh prosecutor Hing Bunchea, accompanied by 200 military police and district police officers and Mr Haing's bodyguards, oversaw the order's implementation, said Mr Huot.

"This land dispute was prolonged and complicated. But our local authorities successfully ended this problem and removed a headache for us," Mr Huot said, adding that the residents believed the events were orchestrated long before yesterday by powerful men. He declined to elaborate.

"This is very unjust for our 42 families," said Kun Sunlok, 42.

"We don't know where we will stay."

Ms Sunlok claimed that the families had been living there legally. "It is unjust because we bought this land legally. Now they stormed our property and demolished our homes," she said as she and other women wept in front of her home as authorities ordered two excavators and bulldozers to raze the village.

Ms Sunlok wondered aloud why, if the land belonged to Mr Haing, he let them live there for so long: "Why allow us to build, to buy and fill earth and live here for seven years?"

She said the value of the homes ranged from $80,000 to $120,000. "We are sorry that our houses were demolished, because they were equally our lives."

On Wednesday, Ngeth Both, a representative of the Tuol Kok village residents, said the land had been sold to the residents by Taing Chhun Eng, the wife of Meas Savoeun, the former owner of the land and winner of the original lawsuit in 2004. After appeals lodged in 2007 were heard by the Appeal Court and Supreme Court, the land was instead awarded to Mr Haing.

Yesterday, Mr Both said, four women fainted, including his wife, and required medical attention.

One house in the village to avoid destruction was once owned by Deputy Prime Minister Nhiek Bun Chhay, Funcinpec secretary-general, Mr Both said, adding that Mr Bun Chhay had sold it to Mr Haing.

Mr Bun Chhay said yesterday that he empathized with his former neighbors, all former Funcinpec members.

"I sold my house at a cheap price a year ago. I left the area. I used to help our people for many years to try to suspend the Supreme Court decision," Mr Bun Chhay said. "I am sorry that I cannot help them, that I have no ability to help them. I have pity for my colleagues that their houses were demolished, that I can't help reach a compromise in their case."

Chan Soveth, chief monitor for the human rights organization Adhoc, saw the destruction as a waste.

"They demolished dozens of buildings without considering those houses are expensive," he said, denying that the residents did anything wrong. "Our villagers did not steal those land lots. They bought it from owner Meas Savoeun, who won the court case in 2004," he said, noting that Mr Savoeun was arrested in Preah Vihear for illegal logging in 2007.

Mr Soveth held out hope that the residents could seek compensation.

Saing Soenthrith/The Cambodia Daily

An excavator tears down a wall yesterday in Phnom Penh's Russei Keo district, carrying out a Supreme Court order to demolish 44 homes in Tuol Sangke commune's Tuol Kok village.

# ផ្ទះ៤៤ខ្នងនៅខណ្ឌឫស្សីកែវត្រូវបានវាយកម្ទេចចោលតាមដីកាបង្គាប់របស់តុលាការ

ដោយ សាំង សុឥន្ទរិទ្ធ
THE CAMBODIA DAILY

ការអំពាវនាវចុងក្រោយរបស់ប្រជាពលរដ្ឋនៅក្នុងឫស្សីកែវ ក្រុងភ្នំពេញទៅលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន និងលោកស្រី ប៊ុន រ៉ានី ដែលជាភរិយារបស់លោកនោះមិនបានលទ្ធផលទេ ខណៈដែលពួកគាត់ឈរសម្លឹងមើលផ្ទះរបស់ពួកគាត់ត្រូវគេវាយកម្ទេចចោលកាលពីម្សិលមិញទាំងទឹកភ្នែក ។

ប្រជាពលរដ្ឋបានហៅឈ្មោះលោក ហ៊ុន សែន និងលោកស្រី ប៊ុន រ៉ានី មុនពេលត្រាក់ទ័រកាយដី និងត្រាក់ទ័រឈូសដី ឈូសកម្ទេចផ្ទះ៤៤ខ្នងនៅក្នុងភូមិទួលគោក សង្កាត់ទួលសង្កែតាមដីកាបង្គាប់ឆ្នាំ២០០៧ របស់តុលាការកំពូលដែលប្រគល់ដីនេះទៅទេសរដ្ឋមន្ត្រីម្នាក់ក្នុងជួររដ្ឋាភិបាល ។

លោក ឃ្លាំង ហួត ជាអភិបាលខណ្ឌបានមាន ប្រសាសន៍ថា ជម្លោះដ៏អូសបន្លាយរវាងប្រជាពលរដ្ឋ និងទេសរដ្ឋមន្ត្រី ឃុន ហាំង ដែលជាអនុប្រធានអាជ្ញាធរជាតិដោះស្រាយជម្លោះដីធ្លីឥឡូវនេះ គឺចប់សព្វគ្រប់ហើយ ។ "ដីនេះជាកម្មសិទ្ធិរបស់លោក ឃុន ហាំង ពីព្រោះលោកមានប័ណ្ណកម្មសិទ្ធិ ។

លោក ឃ្លាំង ហួត បានមានប្រសាសន៍ថា លោក និងលោក ហ៊ីង ប៊ុនជា ព្រះរាជអាជ្ញារងក្រុងតុលាការភ្នំពេញ ដែលអមដោយកងរាជអាវុធហត្ថ និងមន្ត្រីនគរបាលខណ្ឌ២០០នាក់ និងអង្គរក្សលោក ឃុន ហាំង មួយចំនួនផងនោះបានពិនិត្យមើលការអនុវត្តតាមដីកាបង្គាប់នេះ ។

លោក ឃ្លាំង ហួត បានមានប្រសាសន៍ថា "ជម្លោះដីធ្លីនេះបានអូសបន្លាយ និងស្មុគស្មាញណាស់ ។ ប៉ុន្តែអាជ្ញាធរក្នុងមូលដ្ឋានរបស់យើងបញ្ចប់បញ្ហានេះដោយជោគជ័យ ហើយបំបាត់ការឈឺក្បាលរបស់យើងហើយ" ដោយបន្ថែមថា ប្រជាពលរដ្ឋជឿថា រឿងនេះត្រូវបានរៀបចំឡើងជាយូរមកហើយមុនថ្ងៃម្សិលមិញដោយក្រុមអ្នកមានអំណាច ។ លោកបានបដិសេធមិនផ្តល់ព័ត៌មានលំអិត ។

អ្នកស្រី គុន ស៊ុនឡុក អាយុ៤២ឆ្នាំ បាននិយាយថា "វាមិនយុត្តិធម៌ទេសម្រាប់ប្រជាពលរដ្ឋយើងទាំង៤២គ្រួសារ ។ យើងមិនដឹងថានឹងទៅស្នាក់នៅទីណាទេ" ។

អ្នកស្រី ស៊ុនឡុក បានអះអាងថា គ្រួសារប្រជាពលរដ្ឋទាំងនេះបានរស់នៅទីនេះដោយស្របច្បាប់ ។

ខណៈពេលអ្នកស្រី និងស្ត្រីដទៃទៀតយំពីមុខផ្ទះរបស់ខ្លួននៅពេលក្រុមអាជ្ញាធរបញ្ជាឱ្យត្រាក់ទ័រកាយដី និងត្រាក់ទ័រឈូសដី២គ្រឿងឈូសកម្ទេចភូមិនោះ អ្នកស្រីបាននិយាយថា "វាមិនយុត្តិធម៌ទេពីព្រោះយើងទិញដីនេះដោយស្របច្បាប់ ។ ឥឡូវនេះពួកគេមកដណ្តើមយកដី និងកម្ទេចផ្ទះរបស់យើងទៀត" ។

អ្នកស្រី ស៊ុនឡុក បាននិយាយឮៗថា ប្រសិនបើដីនេះជារបស់លោក ឃុប ហាំង មែន ហេតុអ្វីបានជាគាត់បណ្តោយឱ្យប្រជាពលរដ្ឋរស់នៅទីនេះយូរយ៉ាងនេះ ។ " ហេតុអ្វីក៏បណ្តោយឱ្យពួកយើងសង់ផ្ទះ ទិញនិងចាក់ដី ហើយរស់នៅទីនេះរយៈពេល៧ឆ្នាំ?" ។

អ្នកស្រីបាននិយាយថា តម្លៃផ្ទះទាំងនេះមានចាប់ពី៨០.០០០ដុល្លាររហូតដល់ទៅ១២០.០០០ដុល្លារ ។ "យើងសោកស្តាយណាស់ដែលផ្ទះរបស់យើងត្រូវគេវាយកម្ទេចចោល ពីព្រោះវាស្មើនឹងអាយុជីវិតរបស់យើង" ។

កាលពីថ្ងៃពុធ លោក ង៉ែត បុត្រ ជាតំណាងប្រជាពលរដ្ឋនៅភូមិទួលគោក បាននិយាយថា ដីនេះត្រូវបានលក់ឱ្យប្រជាពលរដ្ឋដោយអ្នកស្រី តាំង ឈុនអេង ដែលជាប្រពន្ធរបស់លោក មាស សាវឿន ជាអតីតម្ចាស់ដីនេះ និងជាអ្នកឈ្នះក្តីដំបូងកាលពីឆ្នាំ២០០៤ ។ បន្ទាប់ពីបណ្តឹងឧទ្ធរណ៍ដែលប្តឹងកាលពីឆ្នាំ២០០៧ ត្រូវបានសាលាឧទ្ធរណ៍ និងតុលាការកំពូលបើកសវនាការមកដីនេះត្រូវបានប្រគល់ឱ្យលោក ឃុន ហាំង វិញ ។

កាលពីម្សិលមិញលោក ង៉ែត បុត្រ បាននិយាយថា ស្ត្រី៤បានសន្លប់រួមទាំងប្រពន្ធលោកផងដែរ ហើយចាំបាច់ត្រូវការការព្យាបាល ។

លោក ង៉ែត បុត្រ បាននិយាយថា ផ្ទះមួយខ្នងនៅភូមិនេះ ដែលរួចផុតពីការវាយកម្ទេចចោលនោះ គឺជាផ្ទះដែលធ្លាប់ជាកម្មសិទ្ធិរបស់លោកឧបនាយករដ្ឋមន្ត្រី ញឹក ប៊ុនឆៃ ដែលជាអគ្គលេខាធិការគណបក្សហ៊្វុនស៊ិនប៉ិច ដោយបានបន្ថែមថា លោក ញឹក ប៊ុនឆៃ បានលក់ផ្ទះនេះទៅឱ្យលោក ឃុន ហាំង ។

លោក ញឹក ប៊ុនឆៃ បានមានប្រសាសន៍កាលពីម្សិលមិញថា លោកយល់ពីអារម្មណ៍របស់អតីតអ្នកជិតខាងលោកដែលទាំងអស់គ្នាជាអតីតសមាជិកគណបក្ស ហ៊្វុនស៊ិនប៉ិច ។

លោក ញឹក ប៊ុនឆៃ បានមានប្រសាសន៍ថា "ខ្ញុំបានលក់ផ្ទះរបស់ខ្ញុំក្នុងតម្លៃថោកកាល១ឆ្នាំមុន ។ ខ្ញុំបានចាកចេញពីតំបន់នោះហើយ ។ ខ្ញុំធ្លាប់ជួយពួកគេជាច្រើនឆ្នាំមកហើយក្នុងការព្យាយាមព្យួរការចេញសេចក្តីសម្រេចរបស់តុលាការកំពូល ។ ខ្ញុំសោកស្តាយដែលខ្ញុំមិនអាចជួយពួកគាត់បាន ដោយសារខ្ញុំគ្មានសមត្ថភាពជួយពួកគាត់ ។ ខ្ញុំអាណិតអាសូរសហសេវិករបស់ខ្ញុំដែលផ្ទះរបស់ពួកគេត្រូវបានបំផ្លាញ ហើយដែលខ្ញុំមិនអាចជួយសម្រេចនូវការសម្រុះសម្រួលមួយនៅក្នុងរឿងក្តីរបស់ពួកគេ" ។

លោក ចាន់ សាវ៉េត ប្រធានផ្នែកឃ្លាំមើលនៅអង្គការសិទ្ធិមនុស្សអាដហុកបានចាត់ទុកការវាយកម្ទេចផ្ទះទាំងនេះថា ជាការខ្ជះខ្ជាយ ។

ដោយបដិសេធថា ប្រជាពលរដ្ឋមិនបានធ្វើអ្វីខុសនោះ លោកបានមានប្រសាសន៍ថា "ពួកគេវាយកម្ទេចផ្ទះរាប់សិបខ្នងដោយគ្មានពិចារណាថា ផ្ទះនេះមានតម្លៃថោកនោះទេ" ។

លោកបានមានប្រសាសន៍ថា "អ្នកភូមិរបស់យើងមិនបានលួចដីទាំងនោះទេ ។ ពួកគាត់បានទិញពីលោក មាស សាវឿនត្រូវបានចាប់ខ្លួននៅក្នុងខេត្តព្រះវិហារពីបទកាប់ឈើខុសច្បាប់កាលពីឆ្នាំ២០០៧ ។

លោក ចាន់ សាវ៉េត នៅតែសង្ឃឹមថា ប្រជាពលរដ្ឋអាចស្វែងរកសំណងបាន ៕

# Premier to Declare Assets At Anticorruption Unit

Prime Minister Hun Sen was expected to declare his assets at the Anticorruption Unit today in an effort to encourage other government officials to meet the April 7 deadline, ACU spokesman Keo Remy said yesterday. "This is an example," he said. "It is important that he himself as prime minister comes to declare his assets to show and encourage other officials to follow him and hurry to declare their assets before the deadline." In a statement issued last week, ACU President Om Yentieng said only a quarter of the roughly 25,000 officials required to divulge their assets had done so. Mr Remy said yesterday that the April 7 deadline would only apply to civil servants and elected officials. After that date, the ACU in conjunction with the National Council for Anticorruption will determine which civil society leaders and appointed officials will be required to declare their assets. According to the anticorruption law, officials must redeclare their assets every two years, and any official who does not may be jailed for up to a year. *(Neou Vannarin)*

# នាយករដ្ឋមន្ត្រីនឹងប្រកាសទ្រព្យសម្បត្តិនៅអង្គភាពប្រឆាំងអំពើពុករលួយនៅថ្ងៃនេះ

ដោយ នៅ វណ្ណារិន, THE CAMBODIA DAILY

លោក កែវ រ៉េមី ជាអ្នកនាំពាក្យអង្គភាពប្រឆាំងអំពើពុករលួយបានមានប្រសាសន៍កាលពីម្សិលមិញថា លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ត្រូវបានរំពឹងថា នឹងប្រកាសទ្រព្យសម្បត្តិរបស់លោកនៅឯអង្គភាពប្រឆាំងអំពើពុករលួយនៅថ្ងៃនេះនៅក្នុងកិច្ចប្រឹងប្រែងមួយដើម្បីជំរុញមន្ត្រីរដ្ឋាភិបាលផ្សេងៗទៀតឱ្យអនុវត្តតាមឱសានវាទនៅថ្ងៃទី៧ខែមេសា ។

លោកបានមានប្រសាសន៍ថា "នេះគឺជាគំរូមួយ ។ វាជារឿងសំខាន់ដែលខ្លួនលោកផ្ទាល់ក្នុងឋានៈជានាយករដ្ឋមន្ត្រីចេញមកប្រកាសទ្រព្យសម្បត្តិរបស់លោកដើម្បីបង្ហាញ និងជំរុញមន្ត្រីផ្សេងៗទៀតឱ្យអនុវត្តតាមលោក និងប្រញាប់ប្រកាសទ្រព្យសម្បត្តិរបស់ខ្លួនមុនឱសានវាទនេះ" ។

នៅក្នុងសេចក្តីថ្លែងការណ៍មួយដែលចេញកាលពីសប្តាហ៍មុន លោក ឱម យ៉ិនទៀង ជាប្រធានប្រឆាំងអំពើពុករលួយបានលើកឡើងថា មានតែមួយភាគបួនប៉ុណ្ណោះនៃមន្ត្រីប្រហែល២៥.០០០នាក់ដែលតម្រូវឱ្យប្រកាសទ្រព្យសម្បត្តិរបស់ខ្លួនបានប្រកាសទ្រព្យសម្បត្តិ ។

លោក កែវ រ៉េមី បានមានប្រសាសន៍កាលពីម្សិលមិញថា ឱសានវាទថ្ងៃទី៧ ខែមេសា គ្រាន់តែអនុវត្តទៅលើមន្ត្រីរាជការ និងមន្ត្រីដែលត្រូវបានជ្រើសរើសតែប៉ុណ្ណោះ ។

បន្ទាប់ពីកាលបរិច្ឆេទនោះ អង្គភាពប្រឆាំងអំពើពុករលួយរួមជាមួយនឹងក្រុមប្រឹក្សាជាតិប្រឆាំងអំពើពុករលួយនឹងកំណត់ថា តើមេដឹកនាំសង្គមស៊ីវិល និងមន្ត្រីណាខ្លះដែលត្រូវបានតែងតាំងដោយអនុក្រឹត្យនឹងត្រូវតម្រូវឱ្យប្រកាសទ្រព្យសម្បត្តិរបស់ខ្លួន ។

យោងតាមច្បាប់ប្រឆាំងនឹងអំពើពុករលួយក្រុមមន្ត្រីត្រូវតែប្រកាសទ្រព្យសម្បត្តិរបស់ខ្លួនឡើងវិញរៀងរាល់២ឆ្នាំម្តង ហើយមន្ត្រីណាមួយដែលមិនអនុវត្តតាមអាចនឹងត្រូវជាប់ពន្ធនាគាររហូតដល់រយៈពេលមួយឆ្នាំ ៕

